# មេរោគហឺវ និង ជំងឺអេដស៍ៈ តើធ្វើអោយអ្នកគ្រោះថ្នាក់ទេ ?












DEPARTMENT OF HEALTH AND HUMAN SERVICES
Centers for Disease Control and Prevention

CDC
CENTERS FOR DISEASE CONTROL AND PREVENTION

Khmer

## តើ មេរោគហ៊ីវ និង អេដស៍គឺជាអ្វី តើខ្ញុំអាចឆ្លងមេរោគនេះដោយវិធីណា ?

ហ៊ីវ - គឺជាវីរូដែលសំលាប់កោសិការ របស់អ្នក "កោសិការ CD4 ទាំងឡាយ" ( ហៅថា T-helper" ) ដែលជួយរាងកាយរបស់អោយអ្នកកំចាត់ជំងឺឆ្លង និង រោគដ៏ទៀត ។ មេរោគហ៊ីវ អាចឆ្លង ពីមនុស្ស ម្នាក់ ទៅមនុស្សម្នាក់ទៀត ប្រសិនបើ អ្នកមានអ្នកផ្ទុកមេរោគហ៊ីវ រួមភេទ ឬក៏ ប្រើម្ជុលចាក់ថ្នាំជាមួយអ្នកដ៏ទៃទៀត ។ មេរោគហ៊ីវ អាចឆ្លងពីម្តាយ ទៅកូននៅពេល ម្តាយមានផ្ទៃពោះ ឬ នៅពេលដែល ម្តាយសំរាលកូន ឬក៏ឆ្លងតាមការបំបៅដោះកូន ។

## តើមេរោគអេដស៍ជាអ្វី ?

អេដស៍- គឺជារោគសញ្ញាជំងឺ ម្យ៉ាងដែលឆ្លងពេលដែលមេរោគហ៊ីវបំផ្លាញ ប្រពន្ធ័ កោសិការការពាររាងកាយរបស់អ្នក ។ ជាធម្មតា ប្រពន្ធ័ការពារមេរោគរបស់អ្នក ជួយកំចាត់នៅជំងឺទាំងឡាយក្នុងខ្លួនអ្នក ។ នៅពេលដែល ប្រពន្ធ័ការពារ របស់អ្នកមិនអាចទ ប់ទល់បាន អ្នកនិងមានជំងឺ និង បណ្តាលអោយ ស្លាប់បាន ។

## តើខ្ញុំត្រូវដឹងអ្វីខ្លះអំពីមេរោគហ៊ីវ ?

ករណីដំបូង នៃ មេរោគអេដស៍ គេរកឃើញនៅក្នុងសហរដ្ឋអាមេរិកឆ្នាំ 1981, ក៏ប៉ុន្តែ មេរោគអេដស៍ ទំនងកកើតនៅសហរដ្ឋអាមេរិក និង នៅក្នុងប្រទេស ដ៏ទៀតលើភិភពលោកជាច្រើនឆ្នាំមកហើយ ។ នៅក្នុង ឆ្នាំ 1984 អ្នកវិទ្យាសាស្ត្រ បានអោយដឹង ថា មេរោគហ៊ីវ បណ្តលអោយ កើតអេដស៍ ។

មនុស្សគ្រប់រូបអាចឆ្លងមេរោគហ៊ីវបានដូចគ្នា ។ រឿងដែលសំខាន់ ជាងគេនោះ គឺអ្នកត្រូវដឹងថា តើអ្នកវឆ្លងវីរូសចូលក្នុងរាងកាយអ្នកដោយវីធីណា ។

អ្នកឆ្លងមេរោគហ៊ីវតាម :

- គាររួមភេទមិនមានការការពារ-រួមភេទដោយមិនប្រើស្រោមអនាម័យ ជាមួយ មនុស្សដែលមានផ្ទុកមេរោគហ៊ីវ ។ វីរូសអាច ឆ្លងតាមឈាម , ទឹកកាម , ឬ វន្ទយោនី ការបន្ទើមផ្លូវភេទ ឬក៏ចូលទៅក្នុងរាងកាយរបស់អ្នកដោយការ មុតបន្តិបន្តួច ឬ តាមដំបៅនៅលើស្បែករបស់អ្នក ឆ្លងតាមយោនី , លិង្គ, ឬចុងពោះវៀន , ឬតាមមាត់ ។

- ការប្រើម្ជុល និង សារាំង ចាក់ថ្នាំរួមគ្នា ឬក៏ ប្រើប្រាស់សំភារៈពេទ្យរួមគ្នាក្នុងការ រៀបចំថ្នាំសំរាប់ចាក់ ជាមួយអ្នកដែលមានផ្ទុកមេរោគហីវ ។
- ការបញ្ចូលឈាមមុនឆ្នាំ 1985 បានមកពីនាក់មានមេរោគហីវ ។( ក៏ប៉ុន្តែ បច្ចុប្បន្ននេះ វាមិនអាចឆ្លងតាមវិធី នេះទៀតទេពីព្រោះឈាមនៅសហរដ្ឋអា មេរិក ត្រូវបានគេធ្វើពិសោធន៍ អំពីមេរោគហីវ ចាប់តាំង ពីឆ្នាំ 1985 មកម្លេះ ) ។



ទារក ទាំងឡាយដែល ចាប់កំនើតក្នុងផ្ទៃម្តាយដែល មានផ្ទុកមេរោគហីវ  អាចឆ្លង កំឡុងពេលម្តាយ មានផ្ទៃ ពោះ , ឬក៏ពេលសំរាលកូន ឬក៏ តាមការបំបៅដោះកូន ។

អ្នកមិនអាច ឆ្លងមេរោគហីវតាមករណីដូចខាងក្រោម :

- ធ្វើការជាមួយ ឬនៅជាមួយអ្នកដែលផ្ទុកមេរោគហីវ ។

- ការចេញញើស , កំហាក, ទឹកភ្នែក , សំល្បៀកបំពាក់ , ឬ ទីកន្លែងដែល ប្រើ ប្រាស់ទឹកសាធារណៈ ,ទូរសព្ទ , បង្គន់ , ឬ ក៏តាមរយៈ អាហារដែលបរិភោគ ជាមួយគ្នារាល់ថ្ងៃ ។
- សត្វ ល្អិតខាំ ឬ ទិច ។
- ការផ្តល់ឈាម ។
- ការបឺតមាត់ ឬ ថើប ( ប៉ុន្តែរ វាមាន ឱកាសតិចតួចណាស់ក្នុង ការឆ្លងពីការ ថើបបឺតមាត់ គ្នា ដោសារឈាមមានលទ្ធភាពទាក់ទងគ្នាបាន) ។

**តើខ្ញុំ អាចការពារខ្លួន ដោយវិធីណា ?**

- កុំប្រើប្រាស់ម្ជុល ឬក៏ សារាំង ចាក់ថ្នាំ ជាមួយគ្នា,សារធាតុគីមីសំរាប់ព្យាបាលរោគ , វិតាមិន , ឬក៏ ការចាក់សាក់ ឬ ដោយធ្វើអោយមុតសាច់ ។ គុំប្រើឧបករណ៏សំរាប់រៀចចំថ្នាំសំរាប់ចាក់រួមគ្នា ។មនុស្សភាគច្រើនឆ្លងមេរោគហីវ រោគរលាកថ្លើម និង មេរោគផ្សេង១ ទៀត តាមវិធីខាងលើនេះ។ មេរោគ រស់នៅក្នុងម្ជុល ហើយ យកម្ជុលនេះ ចាក់មនុស្សផ្សេង វាអាចឆ្លងបាន។

- វិធីទុកចិត្តបំផុតដើម្បីជៀសវៀងពីការឆ្លងជំងឺកាមរោគ គឺត្រូវធ្វើការរួមភេទ ឬ រៀបការជាមួយដៃគូមួយទល់នឹងមួយដែលធ្វើតិសឈាមរួច ហើយ អ្នកដឹងថាគ្មានជំងឺការមរោគ ។
- ចំពោះមនុស្សមានអាកប្បកិរយារួមភេទអាចគ្រោះថ្នាក់ដល់ជំងឺឆ្លង ការប្រើប្រាស់ស្រោមអនាម័យ ត្រឹមត្រូវ និង ជាប្រចាំ អាចកាត់បន្ថយការឆ្លងជំងឺកាមរោគនេះបានដែរ ។ ទោះបីជាយ៉ាងណាក៏ដោយក៏គ្មានវិធីណាមួយអាចការពារមិនអោយឆ្លងមួយរយភាគរយបានទេ ។ ការរួមភេទដោយប្រើស្រោមអនាមយ័ក៏មានមិនអាចធានាថាមិនអោយឆ្លងបានដែរ ។ កាលណាអ្នក រួមភេទជាមួយអ្នកមានដៃគូច្រើន អ្នកមានឱកាសឆ្លងមេរោគហីវ ឬ ក៏ជំងឺផ្សេងៗក៏កាន់តែខ្លាំងដែរ ។



- ស្រោមអនាម័យដែលមានសារធាតុសំរាប់ការពារទឹកាមរបស់ស្រ្តី មិនមានប្រសិទ្ធិភាពជាងស្រោម អនាម័យដែលមានជាតិលំអិលការពារជំងឺហីវ និង ជំងឺកាមរោគដ៏ទៃទៀតដែរ ។ ដើម្បីប្រើស្រោម អនាម័យអោយមានប្រសិទ្ធិល្អ អ្នកត្រូវប្រើអោយបានត្រឹមត្រូវ និង ជាប្រចាំគ្រប់ពេលរួមភេទ ។ ការប្រើស្រោមមិនត្រឹមត្រូវអាចនាំអោយរបូ

ត ឬ បែក ដូច្នេះធ្វើអោយបាត់ ប្រសិទ្ធិភាព ។ ការប្រើ ស្រោមមិនទៀតទាត់--- ឧទាហរណ៍ មិនប្រើស្រោម ពេលរួមភេទ អាចឆ្លងជំងឺកាមរោគបាន ពីព្រោះថាការឆ្លងនេះអាច កើត ឡើងក្នុងសកម្មភាពតែមួយនៃការរួមភេទ តែប៉ុណ្ណោះ ។

- កុំប្រើប្រាស់ឡាម ឬ ច្រាសដុសធ្មេញរួមគ្នា ពីព្រោះ ឈាមអាចមានលទ្ធភាព ទាក់ទងគ្នាបាន ។
- ប្រសិនអ្នកមានផ្ទៃ ពោះ អ្នកត្រូវពិភាក្សាជាមួយគ្រូពេទ្យ ឬក៏ ជាមួយមន្ទីរសុខាភិបាលក្នុងដំបន់ដែលរស់នៅនោះ ធ្វើការពិនិត្យអំពីមេរោគីហវ ។ ការព្យាបាលដោយថ្នាំអាចជួយកាត់បន្ថយឳកាសនៃការឆ្លង មេរោគហីវ ទៅកូនរបស់អ្នក ប្រសិនបើអ្នកមានមេរោគ ។

## តើខ្ញុំអាចដឹងថាខ្ញុំមានមេរោគហីវ ឬក៏ អេដស៍ដោយវិធីណា ?

អ្នកមានមេរោគហីវ ហើយអ្នកនៅតែមានសុខភាពល្អដដែល ។វិធីដែល អ្នកគួរដឹងថាតើមានមេរោគ វី អត់ គឺធ្វើតិសឈាម ។ គួរតែពិភាក្សា ជាមួយអ្នកមានចំណេះដឹងខាងផ្នែកសុខភាពមុននិងក្រោយពេលធ្វើតិស ។អ្នកអាច ជួបវេជ្ជបណ្ឌិតរបស់អ្នក ឬក៏ មន្ទីរសុខាភិបាល ដើម្បីធ្វើការត្រួតពិនិត្យ ឬក៏

ទិញឧបករណ៍ប្រើប្រាស់ផ្ទាល់ខ្លួន( ដើម្បីធ្វើពិសោធន៍មេរោគហ៊ីវ) នៅតាមឱសថដ្ឋាន នានា។ ក្រទីកន្លែងពិគ្រោះយោបល់ ឬ ធ្វើតិសមេរោគហ៊ីវ ឬក៏ ទូរសព្ទ័មក កាន់មន្ទីរសុខាភិបាល ឬក៏ ទូរសព្ទ័មកមជ្ឈមណ្ឌល CDC National AIDS Hotline, at **1-800-342-AIDS (2437).**

គ្រូពេទ្យរបស់អ្នក ឬក៏ អ្នកថែរក្សាសុខភាពរបស់អ្នកអាចធ្វើការពិនិត្យ មេរោគហ៊ីវដោយសំងាត់ ។ ពត៌មាន ស្តីពីការពិនិត្យមេរោគហ៊ីវ និង លទ្ធផល ឯនការត្រួតពិនិត្យសុខភាពរបស់អ្នកត្រូវរក្សាជាការសំងាត់ ។ពត៏មានអាចអោយដឹង ចំពោះតែមនុស្សដែលគេអនុញ្ញាតិអោយមើលកំណត់ហេតុនៃការត្រួតពិនិត្យសុខភាព របស់អ្នកតែប៉ុណ្ណោះ ។ អ្នកអាចសួរទៅវិជ្ជបណ្ឌិតរបស់អ្នក អាចសួរអ្នកផ្តល់សេវា កម្មសុខភាព ឬក៏សួរអ្នកពិគ្រោះយោបល់មេរោគហ៊ីវ នៅកន្លែងដែលធ្វើតិស ដើម្បី អោយពន្យល់ថាតើអ្នក ណាខ្លះអាចដឹងពត៌មាននេះបាន។ ឧទាហរណ៍ :អ្នកចង់ សួរថា តើក្រុមហ៊ុនធានារ៉ាប់រងរបស់អ្នកអាចដឹងអំពីស្ថានភាពមេរោគហ៊ីវ បានប្រសិនបើអ្នកទាមទារផលប្រយោជន៍នៃការធានារ៉ាប់រងសុខភាព ឬក៏អ្នកដាក់ ពាក្យសុំការធានារ៉ាប់រងជីវិត ឬ ការធានារ៉ាប់រងស្តីពីពិការភាពនៃសរីរាង្គ ។



តាមបណ្តារដ្ឋនានា អ្នកអាចធ្វើតិសដោយអនាមិក ។ ការធ្វើតិសនេះជាទូទៅ ធ្វើនៅកន្លែងពិសេសដែលគេដឹងថាកន្លែងធ្វើតិសជាសំងាត់ ។ពេលដែលអ្នកធ្វើតិស អនាមិក នៅកន្លែងធ្វើតិស កត់លេខសំងាត់ឬលេខកូដជាមួយនិងលទ្ធផលតិស ដោយមិនប្រាប់ឈ្មោះរបស់អ្នកទេ ។ អ្នកពិគ្រោះយោបល់ និង អោយលេខ សំងាត់នេះទៅ នៅពេលដែលគេយកឈាម ទឹកមាត់ ឬក៏ទឹកនោមរបស់ទៅធ្វើតិស ហើយអ្នកត្រឡប់មកកន្លែងធ្វើតិសវិញ ( ឬក៏ទូរសព្ទ មកកន្លែងធ្វើតិស ឧទាហរណ៏ ចង់បានរបស់របរប្រើប្រាស់សំរាប់ធ្វើតិសខ្លួន ) ហើយអោយលេខសំងាត់ ឬ អោយលេខកូដទៅគេ ដើម្បីយកលទ្ធផលតិសរបស់អ្នក ។



អ្នកទំនងជាធ្វើតិសទៅឃើញវិជ្ជមានមេរោគហ៊ីវច្រើនជាងអវិជ្ជមាន ប្រសិនបើអ្នក

- ប្រើប្រាស់ម្ជុល ឬ សឺរ៉ាំងចាក់ថ្នាំរួមគ្នា
- រួមភេទដោយមិនប្រើស្រោមជាមួយអ្នកដែលផ្ទុកមេរោគហ៊ីវ

- មេរោគដែលចំលងតាមការរួមភេទ ដូចជា ជំងឺ ខ្លាមមិដឪ ឬក៏ ប្រមេះ
- បញ្ចូលឈាម ឬក៏ប្តូរឈាមចន្លោះឆ្នាំ ១៩៧៨ និង ១៩៨៥ និង
- រួមភេទជាមួយអ្នកដែលមានប្រការណាមួយខាងលើ ។

## តើខ្ញុំធ្វើដូចម្តេចប្រសិនបើខ្ញុំធ្វើតិសឃើញមានមេរោគហីវ?

ទោះបីជាហីវជាមេរោគឆ្លង ដ៏សាវយ៉ាងណាក៏ដោយ ក៏ការផ្ទុកមេរោគហីវ និង អេដស៍ អាចរស់នៅបានយូរ និងមានសុខភាពល្អ នៅពេលបច្ចុប្បន្ននេះ ក៏សូមអគុណ ជំពោះការព្យាបាលបែបថ្មី និង ដ៏មានប្រសិទ្ធភាព ។ វាសំខាន់ណាស់ ត្រូវមាន វេជ្ជបណ្ឌិត ដែលចេះព្យាបាលជំងឺហីវ ប្រសិន បើអ្នកមិនដឹងវិជ្ជបណ្ឌិតណាដែលចេះ ព្យាបាល ត្រូវពិពិភាក្សាជាមួយអ្នកពិគ្រោះយោបល់ ដែលមានឯកទេសខាងថែ ទាំសុខភាព ឬ អ្នកពិគ្រោះយោបល់ដែលមានការហ្វឹកហ្វឺន ខាងមេរោគហីវ ។

ប្រសិនបើអ្នកមានផ្ទៃពោះ ឬក៏ គ្រោងនិងមានផ្ទៃពោះ ចូរធ្វើការពិភាក្សាជាមួយវេជ្ជបណ្ឌិតព្រោះវាសំខាន់ខ្លាំងណាស់ ។ កត្តាមួយចំនួន ទៀតដែលជួយអោយខ្លួន មានសុខភាពល្អ ដូចខាងក្រោមនេះ :



- ធ្វើតាមការណែនាំរបស់វេជ្ជបណ្ឌិត ។ ណាត់ជួបជាមួយវេជ្ជបណ្ឌិត ។ វេជ្ជបណ្ឌិតរបស់អ្នកអាចចេញវេជ្ជបញ្ជា សំរាប់អ្នកទិញថ្នាំ ។ ញាំថ្នាំតាម វិធីដែលវិជ្ជបណ្ឌិតណែនាំអ្នក ពីព្រោះការញាំថ្នាំខ្លះ អាចធ្វើអោយ មេរោគហីវអាចរីកលូតលាស់ថែមទៀតក៏មាន ។
- ត្រូវធ្វើអោយមានប្រពន្ធ័បន្សាំមេរោគដើម្បីការពារការឆ្លងមេរោគ ដូចជា ជំងឺហើមសួត និង គ្រុនក្តៅ ។ វិជ្ជបណ្ឌិតនិងប្រាប់ពេលវេឡាអ្នកហូបថ្នាំធ្វើអោយមានប្រពន្ធ័បន្សាំមេរោគ
- ប្រសិនបើអ្នជក់បារី និង ប្រើប្រាស់ថ្នាំដែលគ្មានវិជ្ជបញ្ជាពីគ្រូពេទ្យ ត្រូវឈប់ ។

- ញុាំអាហារដែលនាំអោយមានសុខភាពល្អ ។ អាហារនេះនឹងជួយអោយ អ្នក មានកំលាំងខ្លាំងក្លា ធ្វើអោយរាងកាយអ្នកមានថាមពល ឡើងទំងន់ និង ជួយរាងកាយអ្នកឈ្នះជំងឺបាន ។
- ការហាត់ប្រាណអោយបានទៀតទាតធ្វើអោយអ្នកមានកំលាំងខ្លាំង និង រាងស្អាត ។
- ដេក និង សំរាកអោយបានគ្រប់គ្រាន់ ។

## តើខ្ញុំដឹងពីមេរោគហ៊ីវ និង អេដស៍តាមវិធីណាខ្លះ?

អ្នកអាចទូរសព្ទ័ទៅសួរ នៅ ជឌុជ ណាតិវ្យនាលវីឡ្យ លេខ ១-៨០០-៣៤២-២៤៣៧ ( ភាសាអីស្ប៉ាញលេខ ១-៨០០-៣៤៤-៧៤៣២, ទទូលេខ ១-៨០០-២៤៣-៧៨៨៩៥ ) អ្នកទទួលទូរសព្ទ័ជាបុគ្គលិកដែល មានការហ្វឹក ហ្វឺនហើយអាចឆ្លើយ សំនួរ ដែលទាក់ទងទៅជំងឺហីវ និង អេដស៏យ៉ាងឆាប់រហ័ស និង ជាសំងាត់ ។ បុគ្គលិកប្រចាំការអាចចែកឯកសារទាក់ទងជំងឺនេះទៅអ្នក និង អាចជួយអ្នកអោយមានការទំនាក់ទំនងជាមួយអង្គការខាងផ្នែកជំងឺ ហីវ និង អេដស៏បានទៀតផង ។

តាមប្រពន្ធ័អីនធឺណិត អ្នកអាចទទួលពត៌មានពី
**CDC Division of HIV/AIDS Prevention**
**http://www.cdc.gov/hiv/dhap.htm**

ប្រភពពត៌មានដ៏ទៃទៀត
អាចទទួលតាម   ពីបណ្ដាញការពារជាតិ **CDC,**
**http://cdcnpin.org** ឬក៏ សេវាកម្មព្យាបាល
ជំងឺអេដស៍ និង ហ៊ីវ **http://www.hivatis.org**



AIDS Quilt

# ពត៏មានបន្ថែមចំពោះការរស់នៅដោយមានផ្ទុកមេរោគហ៊ីវ និង អេដស៍

## រួមទាក់ទងមជ្ឈមណ្ឌលខាងក្រោមនេះ

### មជ្ឈមណ្ឌលអេដស៏ជាតិ CDC

ជាភាសាអង់គ្លេស (៨00) ៣៤២-AIDS (២៤៣៧)
(២៤ម៉ោងក្នុងមួយថ្ងៃ)

ជាភាសាអេស្ប៉ាញ (៨00)៣៤៤-SIDA(៧៤៣២)
(ចាប់ពីម៉ោង៨ព្រឹក ដល់ ២ ព្រឹក EST)
(ដោយរាប់បញ្ចូល STDS)

TTY (៨00) ២៤៣-៧៨៨៩
(ថ្លង់ ឬក៏ ត្រចៀកធ្ងន់)
(ពីថ្ងៃចន្ទ័ដល់ ថ្ងៃសុក្រ
ពីម៉ោង១0ព្រឹក-១0យប់EST)

## ផ្ដល់ជូនឯកសារដោយមិនគិតកំរៃ

បណ្ដាញមជ្ឈមណ្ឌលជាតិការពារពត៏មាន CDC
ទូរសព្ទ័ក្នុងស្រុក (៨00)៤៥៨-៥២៣១
ទូរសព្ទ័អន្តរជាតិ ១-៣0១-៥៦២-១0៩៨
ប្រអប់សំបុត្រលេខ P.O. 6003
Rockville, MD 20849-6003

## ពត៏ព្យាបាលមេរោគ ហីវ និង អេដស៏ឥតយកកំរៃ:

សេវាកម្មផ្ដល់ពត៏មានព្យាបាលមេរោគអេដស៏ (ACTIS)
ទូរសព្ទ័ (៨00)៤៤៨-0៤៤0

## គ្លីនិផ្ដល់ថ្នាំព្យាបាលសាកល្បង

សេវាកម្មពត៏មានព្យាបាលសាកល្បង (ACTIS)
ទូរសព្ទ័ (៨00)៨៧៤-២៥៧២

## ផលប្រយោជន៏សន្តិសុខសង្គម :

ផ្នែករដ្ឋបាលសន្តិសុខសង្គម ទូរសព្ទ័
(៨00)៧៧២-១២១៣
(អ្នកអាចស្នើរសារដោយផ្ទាល់ដើម្បីទទួលយកផលប្រយោជន៏ស្ដីពីការចូលនិវត្តន៏ ,ពិការភាព ,ផលប្រយោជន៏សំរាប់រស់នៅក្នុងកំណត់ត្រាសន្តិសុខសង្គមរបស់អ្នក)។

កម្មវិធីធានារ៉ាបរងសុខភាពកុមារ
១-៨៧៧-KIDS NOW
(១-៨៧៧-៥៤៣-៧៦៦៩)

CDC Division of HIV/AIDS
Prevention Internet address:
**http://www.cdc.gov/hiv/dhap.htm**

ធ្វើការកែប្រែ : ខែមិនា ឆ្នាំ ២000
មជ្ឈមណ្ឌលជាតិត្រួតពិនិត្យជំងឺ និង ការពារ
មជ្ឈមណ្ឌលជាតិការពារ មេរោគហីវ ,រូទឡ ានដ ទព
កម្មវិធីការពារមេរោគហីវ និង មេរោគអេដស៏
សូមផ្ញើអនុសាសន៏ សំនួមពរ និង សំនើរ មកអ៊ីមែល:
hivmail@cdc.gov